ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខែ ៩






ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៧

ពុ. ស. ២៤៧០

អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង




ទំព័រ

# ព្រះរាជពិធីបុណ្យរាជាភិសេក

# ព្រះបាទសម្តេចព្រះ ស៊ីសុវត្ថិ មុនីវង្ស

ចមចក្រពង្សហរិរាជ បរមិន្ទរ ភូវណៃក្រៃកែវហ្វាសុឡាលៃ្យព្រះចៅក្រុងកម្ពុជាធិបតី

*ជាអម្ចាស់ជីវិតលើត្បូង*

## ក្រុងកម្ពុជាធិបតី

## ព្រះរាជកំណត់បុណ្យរាជាភិសេក

ព្រះបាទសម្តេចព្រះស៊ីសុវត្ថិ មុនីវង្ស ចមចក្រពង្ស ហរិរាជ បរមិន្ទរ ភូវណៃក្រៃកែវហ្វា សុឡាលៃ្យ ព្រះចៅក្រុងកម្ពុជាធិបតី ជាអម្ចាស់ជីវិតលើត្បូង ។

ព្រះអង្គជាព្រះរាជបុត្រាច្បង នៃព្រះបាទសម្តេច ព្រះស៊ីសុវត្ថិ ចមចក្រពង្ស ព្រះចៅក្រុងកម្ពុជាធិបតីនិងសម្តេចព្រះវររាជជននី បរមបពិត្រ ព្រះនាម វ៉ណ្ណា ទ្រង់ប្រសូតនៅក្រុងភ្នំពេញ ក្រុងកម្ពុជាធិបតី នៅថ្ងៃចន្ទ ១០កើតខែបុស្ស ឆ្នាំជូតអដ្ឋស័កព្រះពុទ្ធសករាជ ២៤២០ មហា. សករាជ ១២៣៨ ត្រូវនឹងថ្ងៃ ខែ យ៉ាំងវីយេរ ឆ្នាំបារាំង ១៨៧៨ ។

ទ្រង់បានរៀនវិជ្ជាយុទ្ធនាសង្គ្រាម ក្នុងក្រុងបារាំងសែស ហើយ បានតាំងជាទីសេនាធីបាតៃយ៉ុង ក៏ម៉ងដង្គ មេទ័ពសក្តិ ៤ ក្នុងក្រុមព្យូហៈ បារាំងសែស ហើយបានធ្វើការមានគុណបំណាច់ មហាប្រសើរ

បាទសុវណ្ណបត្រ ជាសម្ដេចព្រះកែវហ្វា រួចទ្រង់ទទួលរាជសម្បត្តិ តពីព្រះបាទសម្ដេចព្រះស៊ីសុវត្ថិ ជាព្រះវររាជបិតា តាំងពីថ្ងៃអង្គារ ១១ កើត ខែស្រាពណ៍ ឆ្នាំថោះ នព្វស័ក ព្រះពុទ្ធសករាជ ២៤៧០ ត្រូវគ្នានឹងថ្ងៃ ៩ ខែ អ៊ូត ឆ្នាំ១៩២៧ ក្នុងព្រះជន្មវស្សា ៥២ ឆ្នាំ ។

## ព្រះរាជពិធីរាជាភិសេក

ចូលបុណ្យ តាំងពីថ្ងៃ សុក្រ ៣ កើត ខែទុតិយាសាឍ ឆ្នាំរោង សំរឹទ្ធិស័ក ព្រះពុទ្ធសករាជ ២៤៧១ រៀងដល់ថ្ងៃពុធ ៩ កើត ខែឆ្នាំជាមួយគ្នា គឺពីថ្ងៃ ២០ សូយេតទៅដល់ ២៥ ខែជាមួយគ្នា ឆ្នាំបារាំង ១៩២៨ ។

តាំងព្រះរាជមណ្ឌលធម្ម ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យមានគ្រែពិធីជាទីតម្កល់ព្រះពុទ្ធរូប ព្រះទេវរូប និងគ្រឿងបញ្ចកុកុធភណ្ឌ និងវីប្រជុំបុណ្យធំ ខាងមុខព្រះមហាស្វេតច្ឆត្រព្រះបល្ល័ង្ក ។ មានរានទេវតា ៣ ថ្នាក់ ៨ ទិសជុំវិញ ព្រះទីនាំងទេវាវិនិច្ឆ័យ និងរានទេវតាធំ ៧ ថ្នាក់ ១ ទៀត តាំងខាងមុខ ព្រះទីនាំងទេវាវិនិច្ឆ័យ តាំងបល្ល័ង្ក ៩ ជាន់ មានព្រះមហាបុស្បុកមាស សម្រាប់ថ្វាយទឹកស្រង់ខាងទិសបូព៌ានៃព្រះទីនាំងទេវាវិនិច្ឆ័យ ។ សង់រោងមណ្ឌល ៤ ទិសជុំវិញ តាមព្រះទ្វារក្រៅកំផែង ព្រះបរមរាជវាំង រោងមណ្ឌលមួយៗ ធំ ៤ ម៉ែត្រ ជ្រុងស្មើ លើករានក្រាលក្ដារ មានរបៀងនិងព្រះរាជវ័តជុំវិញ មានរានទេវតា ៣ ថ្នាក់ ១ និងផងគោមលាបថ្នាំ ១ មានគោម ១ អុជគ្រប់រោងមណ្ឌល ។

ព្រះសង្ឃនាយកទាំងពីរគណៈ និងសេនាបតីនាម៉ឺនសព្វមុខមន្ត្រី ទៅក្រម ក្នុងក្រុងនិងក្នុងខេត្តនៃព្រះនគរ តាំងតុគ្រឿង សក្ការបូជា គោរពទេវតាក្នុងថែវ ក្នុងកំផែងសីមាព្រះបរមរាជវាំង ។

ត្រូវក្រុមរាជបណ្ឌិតព័ន្ធអមព្រះសីមា គ្រប់ព្រះទីនាំងព្រះដំណាក់ទាំងអស់ មកប្រជុំទីនៃគ្រពិធីសូត្រមន្ត ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ។

១- ព្រះរោងមណ្ឌលធំ គឺព្រះទីនាំងទេវាវិនិច្ឆ័យត្រូវស្តេចព្រះឥសីកន្តុជិបតី ១, ព្រះព្រហ្មធិរាជ ១, ព្រះមិន្ទរ ១, ព្រះជ័យាធិរតី ១, ព្រះធម្មរាជ ១, ព្រះបរមចារ ១, ព្រះតេព្វចារ ១ ព្រះឥន្ទគោរព្ភកា ១, ជា ៨ នាក់ កាន់ព្រតតាំងព្រះរាជពិធីចម្រើនព្រះសិទ្ធិរសក្សស់ស័ន្ទ ។

២- រោងមណ្ឌលទិសបូព៌ា ត្រូវព្រះអរិយសាលរ ១, និងបារគូ ៣ នាក់ កាន់ព្រតតាំងព្រះរាជពិធីចម្រើនសិទ្ធិរសក្សស់ស័ន្ទ ។

៣- រោងមណ្ឌលទិសទក្សិណ ត្រូវព្រះធម្មរិទ្ធ ១ និងបារគូ ៣ នាក់ កាន់ព្រតតាំងចម្រើនព្រះសិទ្ធិរសក្សស់ស័ន្ទ ។

៤- រោងមណ្ឌលទិសបស្ចិម ត្រូវព្រះធម្មចារ ១ និងបារគូ ៣ នាក់ កាន់ព្រតតាំងចម្រើនព្រះសិទ្ធិរសក្សស់ស័ន្ទ ។

៥- រោងមណ្ឌលទិសឧត្តរ ត្រូវព្រះឥន្ទសរជ័យ និងបារគូ ៣ នាក់ កាន់ព្រតតាំងព្រះរាជពិធីចម្រើនព្រះសិទ្ធិរសក្សស់ស័ន្ទ ។

## គម្រប់ ១ ថ្ងៃសុក្រ ៣ កើតខែទុតិយាសាឍគឺថ្ងៃ ២០ សូយេត

វេលាម៉ោង ១៦ គឺម៉ោង ៤ រសៀល រៀបពិធីឡើងព្រះទីនាំងព្រះមហាមន្ទីរជាទីប្រថាប់ និង ក្រឡាព្រះបន្ទំព្រះករុណាជាអម្ចាស់ជីវិតលើត្បូង ជាប់នឹងព្រះទីនាំងទេវាវិនិច្ឆ័យ មានព្រះរាជបល្ល័ង្កស្វេតច្ឆ័ត្រខាងក្នុង សម្រាប់ទទួលក្រុមស្ត្រី ត្រង់ព្រះមហាមន្ទីរ មានព្រះទីនាំងចក្រពត្រជាទីក្រឡាព្រះបន្ទំព្រះករុណានៅឯខាងត្បូង និងព្រះទីនាំងនារីរ័ត្នសោភាជាទីក្រឡាបន្ទំសម្រាប់ព្រះមហេសី ឬព្រះស្នំ និងហោគ្រឿងជាទីស្វាយ ឬទុកគ្រឿងទ្រង់នៅខាងលិច ។

ព្រះករុណាទ្រង់ព្រះពស្ត្រពណ៌ខៀវតាមពណ៌ថ្ងៃសុក្រ ស្តេចយាងព្រះបាទលើមាគ៌ាក្រាលសំពត់ស លើកទ្រូលតាមក្បួនហែ ពីព្រះដំណាក់ច័ន្ទ ចូលទៅឡើងព្រះទីនាំងព្រះមហាមន្ទីរតាមទំនៀម ។ ឧកញ៉ាវាំងវរវៀងជ័យ ត្រូវចាំទទួលព្រះករុណាក្នុងព្រះទីនាំងព្រះមហាមន្ទីរ ។

ទីស្តេចក្សត្រីនិងព្រះស្នំក្រុមការនិងដំណាវខុនណាងក្រាបបង្គំគាល់ក្នុងព្រះទីនាំងមហាមន្ទីរ និងក្នុងព្រះទីនាំងនារីរ័ត្នចក្រពត្រសោភា ។

ទីស្តេចក្សត្រានិងឧត្តមមហាសេនាសេនាបតីនាម៉ឺនសព្វមុខមន្ត្រី ក្រាបបង្គំគាល់ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យមុខព្រះមហាបល្ល័ង្កស្វេតច្ឆ័ត្រ ។

ម៉ោង ១៧ និង ៣០ នាទី គឺម៉ោង ៥ កន្លះល្ងាច ព្រះករុណាថ្វាយបង្គំថ្វាយព្រះបិដរក្នុងហោអដ្ឋិ ។

ម៉ោង ១៨ គឺម៉ោង ៦ ល្ងាច ឧកញ៉ាហោរាធិបតីបានហ្វាងស្ត្រប្រកាស

ទេវតា ចូលបុណ្យរាជាភិសេកនៅពនទេវតាធំខាងមុខព្រះទីនាំងទេវា វិនិច្ឆ័យ ។

ម៉ោង ១៨ និង ៣០ នាទី គឺម៉ោង ៦ កន្លះល្ងាច អុជពន្លឺប្រទីប គ្រឿងសក្ការបូជា ក្នុងព្រះបរមរាជវាំង និងពន្លឺខាងក្នុង ខាងមុខព្រះទីនាំង ទេវាវិនិច្ឆ័យនិងគ្រឿងតាំងតុ ។

ព្រះករុណាទ្រង់ព្រះពស្ត្រពណ៌ខៀវ និងព្រះភូសាពណ៌ខៀវ ព្រមទាំង គ្រឿងព្រះរាជឥស្សរិយយស ស្តេចយាងព្រះបាទតាមក្បួនហែ មានស្ត្រី កាន់ផ្កាមាស ៤ ផ្កាប្រាក់ ៤ ប្រណម្យហែមុខ និងស្ត្រីអញ្ជើញគ្រឿង ១៦ នាក់ហែក្រោយ ។ ហែពីក្នុងព្រះទីនាំងព្រះមហាមន្ទីរចេញទ្វារព្រះ ដាយគ្រឿន មកគង់នៅព្រះទីនាំងទេវាវិនិច្ឆ័យ មានសម្តេចព្រះឥសីកទ្ធ ធិបតី អញ្ជើញព្រះនារាយណ៍ហែមុខ ។

ទ្រង់ប្រថាប់លើព្រះទីនាំងកៅអី អុជគ្រឿងពុទ្ធបូជាថ្វាយបង្គំព្រះ រតនត្រៃ ហើយស្តេចយាងទៅអុជទៀនជ័យ ជាមួយនិងព្រះសង្ឃនាយក ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ហើយទ្រង់ថ្វាយត្រៃព្រះសង្ឃ ២៦ អង្គគ្រង រូបក្រុមសង្ឃការីទូងគោំងអាកធនាសីលនិមន្តព្រះសង្ឃចម្រើនព្រះពុទ្ធមន្ត ពិធីឡើងព្រះទីនាំងមហាមន្ទីរ និងធ្វើព្រះសិទ្ធរសព្រះពុទ្ធមន្ត ទុកថ្វាយ ស្រង់ក្នុងបុណ្យរាជាភិសេក ។

ព្រះរាជវង្សានុវង្សគ្រប់អង្គនិងអគ្គមហាសេនាសេនាបតី នាម៉ឺនសព្វមុខ មន្ត្រីចៅក្រមក្នុងក្រុង និងក្នុងខេត្តស្លៀកសំពត់ និងពាក់អាវសារបាប់ពណ៌

ល្បើក ឬ ជាមួយនិងគ្រឿងឥស្សរិយយស ដួបដុំក្រាបថ្វាយបង្គំគាល់តាមដំណែងក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ព្រះសង្ឃចម្រើនព្រះពុទ្ធមន្ត រួចព្រះករុណាស្តេចយាងចូលតាមក្បួនហែចូលទៅប្រថាប់ក្នុងព្រះទីនាំងចក្រពត្រ ទ្រង់គ្រឿងពណ៌ស ទទួលសមាទានសីលក្នុងព្រះទីនាំងទ្រង់ធម៌ជាបរិសុទ្ធក្នុងព្រះអង្គ ។

ម៉ោង ២០ គឺម៉ោង ៨ យប់ លៀងភោជនាហារព្រះរាជវង្សានុវង្ស អគ្គមហាសេនា សេនាបតី នាម៉ឺនសព្វមុខមន្ត្រី និង ចៅក្រម ។

ពីម៉ោង ២១ ដល់ម៉ោង ២៤ គឺពីម៉ោង ៩ យប់ ទៅដល់អធ្រាត្រ កំល្ហានក្នុងពេងព្រះទីនាំងពិធីបុណ្យ និង ល្បែងមហោស្រពខាងមុខព្រះលាន អុជកាំជ្រួចរន្ទាភ្លើទៀន ។

## គម្រប់ពីរ ថ្ងៃសៅរ៍ ៤ កើតខែទុតិយាសាឍ គឺថ្ងៃ ២១ ខែសូយេក

ម៉ោង៩ព្រឹកព្រះករុណាទ្រង់ព្រះពស្ត្រនិងព្រះភូសាពណ៌បាននៅស្តេចយាងតាមក្បួនហែដដែល បេញនិមន្តព្រះសង្ឃដែលបានចម្រើនព្រះពុទ្ធមន្តពីល្ងាចសូត្រតាហុំថ្វាយ វេរព្រះភោជនាហារព្រះសង្ឃឆាន់ ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យមានត្បូងតន្ត្រីមហោរីលេងថ្វាយ រួចទ្រង់ប្រគេនទេយ្យទាន ។

ព្រះរាជវង្សានុវង្ស អគ្គមហាសេនាសេនាបតីនាម៉ឺនសព្វមុខមន្ត្រី និង ចៅក្រមក្នុងក្រុង ក្នុងខែត្រស្លៀកពណ៌ដូចដែលនឹងគ្រឿងឥស្សរិយយស ដួបដុំក្រាបថ្វាយបង្គំគាល់ ។

លេងល្បែងមហោស្រពខាងមុខព្រះបរមរាជវាំងដល់ម៉ោង ១០ព្រឹក។

ព្រះករុណាព្រះរាជទានគ្រឿងឥស្សរិយយស និងរបស់ទុកព្រះកេរ្តិ៍ ខ្ញុំរាជការខ្មែរ ។

ពីម៉ោង ១៥ ដល់ម៉ោង ១៨ គឺពីម៉ោង ៣ រសៀល ដល់ម៉ោង ៦ ល្ងាច កំល្ងានក្នុងព្រះទីនាំងពិធីបុណ្យ និងល្បែងមហោស្រព មុខព្រះលាន ។

ពីម៉ោង ១៨ ដល់ម៉ោង ២៤ គឺពីម៉ោង ៦ ល្ងាចដល់អធ្រាត្រ របៀបបុណ្យដូចថ្ងៃដំបូង ។

–គម្រប់ ៣ ថ្ងៃអាទិត្យ ៥ កើត ខែទុតិយាសាធ គឺ ថ្ងៃ ២២ ខែ ស៊ូយេត :

របៀបបុណ្យដូចថ្ងៃគម្រប់ពីរ ។

ព្រះករុណាទ្រង់ពណ៌ក្រហម ។

– គម្រប់ ៤ ថ្ងៃច័ន្ទ ៦ កើតខែទុតិយាសាធ គឺថ្ងៃ ២៣ ខែស៊ូយេត

ពីម៉ោង ៧ និង ៥ នាទីព្រឹក ជាមួយមហោរីជ័យមង្គល~~ឫក្ស~~ ព្រះករុណាទ្រង់គ្រឿងពណ៌ស ព្រះភូសាផាយស ស្ដេចយាងតាមក្បួនហែដូចដែល មកក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ បារគូផ្លុំស័ង្ខក្រលែងពីងពាំង និងប្រគុំតូរ្យតន្ត្រីថ្វាយតាមទំនៀម ព្រះករុណាថ្វាយបង្គំព្រះពុទ្ធរូប ព្រះទេវរូប និមន្តព្រះសង្ឃដែលសូត្រព្រះពុទ្ធមន្តពីល្ងាច សូត្រជយន្តោថ្វាយជ័យស្រន់ ហើយព្រះករុណាទទួលលោកឡឺគូវ៉ែរណឺរយេណេរ៉ាល់ ដឺឡាំងដូស៊ីន និងលោក ឡឺរ៉េស៊ីដង្ត៍ សុប៉េរីយើរ ឡារ៉េពូព្លិក បារាំងសែស ក្នុងក្រុងកម្ពុជា ជាមួយ នឹង សម្ដេចព្រះសង្ឃនាយកពីរគណៈ និង អគ្គមហាសេនា

✓ សេនាបតី និងសម្តេចព្រះឥសីកន្ទធិបតី ហែស្តេចយាងឡើងលើព្រះបល្ល័ង្ក ក្រោមព្រះមហាបុស្បក តាំងខាងមុខព្រះទីនាំងទេវាវិនិច្ឆ័យ ព្រះករុណាគង់លើផែនសុវណ្ណផរដើរចនា និងផាតិហិក្តិលផាតាពកដសីហ៍ ក្រាលលើស្បែកឧទុម្ពរព្រឹក្ស សម្តេចព្រះឥសីកន្ទធិបតី ថ្វាយស័ង្ខជ័យព្រឹក្ស ព្រះករុណាទ្រង់ទទួលកាន់ព្រះហស្តស្តាំ ជាព្រះតេជចេស្តា ព្រះករុណាឈមព្រះភក្ត្រទៅបួនទិសា ។

ឧកញ៉ា ហោរាធិបតី ចាងហ្វាងក្រុមហោរ សូត្រប្រកាសអញ្ជើញ ✓ ទេវតា សូមចម្រើនសិរីសួស្តីជ័យមង្គល ថ្វាយព្រះករុណានៅទីកនទេវតា ហើយសក្ខណាកាំភ្លើង ២១ ណាត់ ។

ព្រះសង្ឃនាយក ទាំងពីរគណៈ ថ្វាយព្រះឧទកធារាពុទ្ធមន្តស្រង់សម្តេចព្រះឥសីកន្ទធិបតី ថ្វាយព្រះសិទ្ធរសក្ខស័ង្ខ ទ្រង់ស្រង់យោងព្រះកេសា តាមទំនៀម សម្តេចព្រះឥសីកន្ទធិបតីថ្វាយស្បែកញោសៀតព្រះកាណ៌ង្វេង ។

លោកឡឺគ្លែរណើរយេរណារ៉ល់ និងលោកឡឺរេស៊ីដង់សុប៉េរីយើរ និងអគ្គមហាសេនា សេនាធិបតី ក៏ជួយថ្វាយព្រះសិទ្ធរស ទ្រង់ស្រង់រួចហែស្តេចយាងចុះមក ត្រូវព្រះរាមាធិបតី ចាងហ្វាងក្រុមព្រះវង្សបុព្វជូរស្រប់ព្រះបាទព្រះករុណា និងទឹកដូង ទឹកអប់លើថាសមាសថាសប្រាក់ រួចស្តេចយាងសណ្ឋិតលើផែន ផ្លាស់ព្រះពស្ត្រ ព្រះភូសា ហើយស្តេចយាងចូលទៅក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ តាមក្បួនហែយាងទៅប្រថាប់ ក្នុងព្រះទីនាំង

បក្រាពត្រវិញ ទ្រង់គ្រឿងព្រះពស្ត្រ ព្រះភូសាផាយវត្តកម្ពល តាមមហាក្សត្រពីបុរាណពេញព្រះរាជយស ។

ម៉ោង ៩ ព្រឹក ព្រះករុណាទ្រង់គ្រឿងសម្រាប់ព្រះមហាក្សត្រាធិរាជ តាមក្បួនបែបធំដដែល ចេញមកក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ សម្ដេចព្រះឥសីភក្ដីធិបតីទទួលហែមុខទ្រង់ទទួលគំនាប់លោក ឡឺគូវែរណើរយេណេរ៉ាល់ដឺឡាំងដូស៊ីន និងលោក ឡឺរេស៊ីដង់ ស៊ុបេរីយើរ និង អស់លោកអ្នករាជការអ្នកជំនួញបារាំងសែស ដែលមកជួបជុំជួយបុណ្យ រួចទ្រង់ថ្វាយបង្គំព្រះពុទ្ធរូប ព្រះទេវរូប ទទួលសីលថ្វាយព្រះអង្គជាពុទ្ធប្បដ្ឋាក ជាធម្មប្បដ្ឋាក ជាសំឃុប្បដ្ឋាក ហើយវេរភោជនាហារ និង គ្រឿងទេយ្យទានដល់ព្រះភិក្ខុសង្ឃ ១ ថ្វាយព្រះពរនិមន្តទៅឆាន់ឯកុដិ ។

ព្រះករុណា ស្ដេចយាងទៅប្រថាប់លើព្រះទីនាំង កៅអីក្រាលសរបរិសុទ្ធឈមព្រះភក្ត្រទៅទិសបូព៌ មានព្រះរាជគ្រូបារគូបុរោហិតអង្គុយគាល់ជុំវិញទាំង ៨ ទិស មានបារគូក្រៃលែងពីទាំង ៨ នាក់ និងបារគូជុំសង្ខ ទើបសម្ដេចឥសីភក្ដីធិបតីថ្វាយព្រះគស្ទូរ ទ្រង់ឧបព្រះហស្តស្តាំ ថ្វាយព្រះនារាយណ៍ ទ្រង់ឧបព្រះហស្តឆ្វេង ហើយព្រះរាជគ្រូអង្គុយទិសបូព៌ សូត្រថ្វាយព្រះគាថាតាមទិស រួចទ្រង់បង្វិលព្រះអង្គជាទក្ខិណា ដែលឆ្ពោះព្រះភក្ត្រទៅទិសអាគ្នេយ៍ ទិសទក្សិណ ទិសនិរតី ទិសបច្ចិម ទិសពាយ័ព្យ ទិសឧត្តរ និងទិសឦសាន ត្រូវឲ្យបុរោហិតដែលអង្គុយប្រចាំទិស សូត្រថ្វាយព្រះគាថាតាមទិសគ្រប់ ៗ ទិស តាមទំនៀមព្រាហ្មណ៍ រួចទ្រង់ព្រះ

កក្រ្តទៅទិសបូព៌ាវិញព្រះរាជគ្រូប្រចាំទិសទាំង ៨ ថ្វាយសិរីសួស្តីមហាជ័យមង្គលព្រម ៗ គ្នា រួចសម្តេចព្រះឥសីកន្ធថ្វាយព្រះសិទ្ធិរសព្រះរាជស័ង្ខទ្រង់ស្រោយ ។

៩ ឧកញ៉ាពិនិត្យវិនិច្ឆ័យចាងហ្វាងក្រុមព្រះអាលក្ខណ៍ សូត្រព្រះសុវណ្ណ-បត្តថ្វាយព្រះនាម ។

ឧកញ៉ាមហាមន្ត្រីក្រុមវៀនហ្លួង សូត្រថ្វាយព្រះមហាម្កុដរាជ្យ និងរាជសម្បត្តិសួយសារអាករ ព្រះនគរបាលក្រុងកម្ពុជាធិបតី និងព្រះរាជវង្សា-នុវង្សក្សត្រា និងអគ្គមហាសេនា សេនាបតី នាម៉ឺនសព្វមុខមន្ត្រី ខ្ញុំរាជការគ្រប់ដំណែង គ្រប់ទាំងខាងក្នុង ខាងក្រៅ និងស្រែចំការច្បារដំណាំ ទឹកដីព្រៃភ្នំក្នុងខបខណ្ឌសីមា ព្រះមហានគរក្រុងកម្ពុជាធិបតី និងថ្វាយសព្វសា-ធុការពរ រួចព្រះរាជវង្សានុវង្សអគ្គមហាសេនា សេនាធិបតី នាម៉ឺនសព្វមុខមន្ត្រីខ្ញុំរាជការទាំងអស់ ដែលមកជួបជុំនៅទីនោះ មានពាន មានគុជាក់តម្កល់គ្រាសម្រាប់យសសក្តិ និងផ្កានិងទៀនទឹកអប់ តាមយសសក្តិក្រាបថ្វាយបង្គំម្តង ៗ ។

ព្រះករុណាទ្រង់មានព្រះរាជឱង្ការនូវព្រះបន្ទូល ស្ងួរសីហនាទ ព្រះរាជទានសព្វសាធុការពរ ហើយទ្រង់ព្រះរាជទានគ្រាសម្រាប់យសសក្តិមុខងារគ្រប់ដំណែង ឲ្យអស់រាជវង្សានុវង្សអគ្គមហាសេនាសេនាធិបតី នាម៉ឺនសព្វមុខមន្ត្រីទទួលធ្វើរាជការតាមដំណែង ចូលព្រះតេជគុណ និង ព្រះរាជទានស្រែចំការច្បារដំណាំ ទឹកដី ព្រៃភ្នំ ឲ្យអស់ខ្ញុំរាជការប្រជានុរាស្ត្រ

ទៅធ្វើបរទេសស៊ីដោយសុខក្សេមក្សាន្តជាធម្មតាដូចដើមវិញ ។

ខ្ញុំរាជការទាំងអស់ទទួលក្រាបថ្វាយបង្គំម្តង ។

ព្រះករុណាគង់លើព្រះទីនាំងកៅអីមាស ។

លោក គូវែរណឺរយេណេរ៉ាល់ និងលោក ឡឺរេស៊ីដង់សុប៉េរីយើរ ចូលថ្វាយគំនាប់ជួបជុំប្រជុំធំ នាំពតិមានថ្វាយសព្ទសាធុការពរ ពីគូវែរណឺរម៉ង់ ដឺឡារេពូព្លិក បារាំងសែស ដែលទំនុកបម្រុងក្រុងកម្ពុជាធិបតី ហើយអញ្ជើញ និងហែស្តេចឡើងប្រថាប់លើព្រះបល្ល័ង្ករត្ន ក្រោមព្រះមហាស្វេតច្ឆត្រ ៩ ជាន់ សក្ខណាកាំភ្លើង ២១ ណាត់ ហើយសម្តេចឥសីកទូធិបតី អញ្ជើញព្រះមហាម្កុដរាជ ជូនទៅលោកគូវែរណឺរយេណេរ៉ាល់ទ្រង់ថ្វាយព្រះករុណាតាំងព្រះនាមក្រុងបារាំងសែស ។

អញ្ជើញព្រះខ័នរាជ្យជូនទៅលោក ឡឺរេស៊ីដង់សុប៉េរីយើរ ថ្វាយទៅព្រះករុណាទ្រង់ទទួលកាន់ព្រះហស្តស្តាំ ហើយសេនាបតីនិងចៅក្រសួងថ្វាយពានព្រះករ ព្រះសុពណ៌ប៉ាទ និងគ្រឿងសម្រាប់រាជតាមទំនៀម ។

ខ្ញុំរាជការក្រាបថ្វាយបង្គំម្តងទៀត ជាគម្រប់ ៣ ដងស្រេច ។

លោក គូវែរណឺរយេណេរ៉ាល់ ថ្លែងអធិប្បាយ ថ្វាយសព្ទសាធុការពរ ។

ព្រះរាជគ្រូហែ ស្តេចយាងចុះមកគំនាប់លោកគូវែរណឺរយេណេរ៉ាល់ និងលោក ឡឺរេស៊ីដង់សុប៉េរីយើរ ហើយទ្រង់សូត្រព្រះរាជឱង្ការ តបព្រះតេជគុណក្រុងបារាំងសែសដែលជួយរក្សានគរ និងរាជការក្រុងកម្ពុជាធិបតី និងជួយជាអធិបតី ក្នុងការបុណ្យរាជាភិសេកព្រះអង្គ ។

លោក ឡឺគូវែរណឺរយេណេរ៉ាល់ និងលោក ឡឺរេស៊ីដង់សុប៉េរីយ៉េរ និងមហាជនបារាំងសែស ដែលមកជួបជុំតាំងអស់ ចាប់ព្រះហស្តថ្វាយគំនាប់លាព្រះករុណាចេញទៅវិញ ។

ម៉ោង ១០ ព្រឹក ព្រះករុណា ស្តេចយាងតាមក្បួនហែចូលទៅវិញ ដល់ព្រះទីនាំង ទក្សិណប្រថាប់លើព្រះខែន ។ ទើបអ្នកកជានុពង្សក្រាបបង្គំទូលថ្វាយអស់ព្រះរាជវង្សានុវង្សក្សត្រិយ៍ និងព្រះស្នំក្រុមការព្រះស្រិង្គារ និងសព្ទសាធុការពរ ។

ករិយាចាងហ្វាងក្រុមរឿនហ្លួង ក្រាបបង្គំទូលថ្វាយជំទាវខុនណាង និងខ្ញុំរាជការក្សត្រីគ្រប់ក្រុម ហើយថ្វាយសព្ទសាធុការពរ ។

អស់ព្រះរាជវង្សានុវង្សក្សត្រី និងព្រះស្នំក្រុមការ ព្រះសិង្គារជំទាវ ខុនណាង និងខ្ញុំរាជការស្ត្រីគ្រប់ក្រុម មានផ្កា និង ទៀន ទឹកអប់ តម្កល់លើពានលើតុ តាមយសសក្តិ គ្រប់គ្នាក្រាបថ្វាយបង្គំម្តង ។

ព្រះករុណាទ្រង់មានព្រះរាជឧង្ការ ព្រះរាជទានពរសព្ទសាធុការវិញ អស់ខ្ញុំរាជការ ស្ត្រី ក្រាបថ្វាយបង្គំម្តង ។

ព្រះករុណាទ្រង់យាងចូលទៅក្នុងព្រះទីនាំងចក្រពត្រ អស់ខ្ញុំរាជការស្ត្រី ក្រាបថ្វាយបង្គំម្តងទៀត ជាគម្រប់ ៣ ដងស្រេច ។

ម៉ោង ១០ និង ៣០ នាទីព្រឹក ព្រះករុណាទ្រង់គ្រឿងពណ៌ដែល ស្តេចព្រះរាជដំណើរយាងចេញតាមក្បួនហែមក ក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ជួបជុំព្រះរាជវង្សានុវង្ស អគ្គមហាសេនាសេនាបតី នាម៉ឺនសព្វមុខមន្ត្រីថ្វាយ

ព្រះទក្ខិណាបង្វិលព្រះពពិល ១៩ ជុំ ។

លែងមនុស្សទោសគ្រប់គុកក្នុងព្រះនគរ តាមព្រះរាជប្រកាសតាមសេចក្ដីសុំពីកុងស៊ីយ៍ សេនាបតី ។

ម៉ោង ២០ គឺម៉ោង ៨ យប់ ព្រះករុណាទ្រង់ទទួលលៀងភោជនាហារលោកឡឺ គូវែរណើរយេណេរ៉ាល និងលោកឡឺរេស៊ីដង់សុប៉េរីយ៉ើរ ។

ម៉ោង ២២ គឺម៉ោង ១០ យប់ កំណ្សាន្តព្រះរាជទ្រព្យនិងកំសាន្តជំក្នុងព្រះពន្លាច័ន្ទឆាយា ។

## គម្រប់ ៥ ថ្ងៃ អង្គារ ៧ កើតខែទុតិយាសាឍគឺថ្ងៃ ២៨ ស្វយេត

ម៉ោង ៧ ព្រឹក ព្រះករុណាទ្រង់គ្រឿងព្រះពស្ត្រព្រះភូសាពណ៌ស្វាយ ទ្រង់ព្រះមកុដពេញព្រះរាជយស ស្ដេចយាងតាមក្បួនហែចេញពីព្រះទីនាំងទេវាវិនិច្ឆ័យ សក្តុណកាំភ្លើង ២១ ណាត់ ស្ដេចយាងឡើងគង់ព្រះរាជយានុមាត្យ ព្រមដោយក្បួនហែធំ និងព្រះរាជវង្សានុវង្ស ទ្រង់ព្រះពស្ត្រសារុងបាប់ព្រះភូសាផាយពណ៌ និងព្រះមាលាទ្រង់ព្រះពាតប្តព្រះភូសាសក្តិ ព្រះមាលាកាស អគ្គមហាសេនាយោង សេនាបតីគួយៀង ចេញប្រទក្សិណព្រះនគរទ្រង់ប្រោសប្រទានប្រាក់តាមមាគ៌ា តាំងពីមុខព្រះលានទៅទិសបូព៌ា បត់តាមថ្នល់ទៅទក្សិណ ដល់ថ្នល់ទទឹងបត់ទៅទិស បស្ចិមដល់ស្ពានទាគចូលព្រះពន្លាគីក១ ។

លោក ឡឺរេស៊ីដង់ សុប៉េរីយ៉ើរ និង សម្ដេចឥសីកម្ពុធិបតី ចាំទទួល

ព្រះករុណាស្តេចចូលប្រថាប់ ព្រាហ្មណ៍ផ្លុំស័ង្ខថ្វាយជ័យថ្វាយព្រះសិទ្ធរស ក្លស់ស័ង្ខយោងព្រះកេសា ហើយទ្រង់ព្រះជដាបញ្ចាកុដ ឡើងគង់លើព្រះរាជរថទឹម អស្សតរ ៦ តាមក្បួនហែតាមផ្លូវឃ្លាំងប្រេងកាត បត់ទៅឯកើត ដល់ស្ពានឥន្ទធនូ ចូលព្រះពន្លាកក់ ១ ។

លោកឡឺរេស៊ីដង់សុប៉េរីយ៉ើរ និងសម្តេចឥសីភទ្ធធិបតីចាំទទួលព្រះករុណា ព្រាហ្មណ៍ផ្លុំស័ង្ខថ្វាយជ័យ ថ្វាយព្រះសិទ្ធរសក្លស់ស័ង្ខយោងព្រះកេសា រួចទ្រង់ព្រះមហាមាលាឡើងគង់ព្រះវីនាំងអស្សតរតាមផ្លូវធំ មកដល់មុខផ្ទះ ប្រូតិកតូរ៉ក់ ស្តេចចូលប្រថាប់មានក្រុមយុទ្ធនាថ្វាយគំនាប់ ។

មានលោកគូវែរណើរយេណេរ៉ាល់ និងលោកឡឺរេស៊ីដង់សុប៉េរីយ៉ើរ ទទួលថ្វាយសាធុការពរ ព្រាហ្មណ៍ផ្លុំស័ង្ខថ្វាយជ័យ ថ្វាយព្រះឱទកក្លស់ស័ង្ខយោងព្រះកេសា រួចស្តេចទ្រង់ព្រះមហាមាលា ទ្រង់ព្រះពាតឡើងគង់លើព្រះទីនាំងគជេន្ទ្រ ព្រះរាជដំណើរតាមក្បួនហែចូលក្នុងព្រះបរមរាជវាំង ដល់កើយខាងមុខព្រះទីនាំងសម្រាន្តកិរម្យ ទ្រង់យាងតាមព្រះទីនាំងសម្រាន្តកិរម្យ សត្ថុណាកាំភ្លើង ២១ ដង ។

លោក ឡឺរេស៊ីដង់ សុប៉េរីយ៉ើរ និងសម្តេចព្រះឥសីភទ្ធធិបតីទទួលហែព្រះករុណាទៅក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ព្រាហ្មណ៍ផ្លុំស័ង្ខថ្វាយជ័យ ថ្វាយព្រះសិទ្ធរសក្លស់ស័ង្ខ រួចហែស្តេចយាងតាមក្បួនហែចូលទៅប្រថាប់ក្នុងព្រះទីនាំងព្រះមហាមន្ទីរ ។

ល្បែងមហាស្រពលេង និង ល្ខោនរាំដល់ម៉ោង ១៨ គឺម៉ោង ៦ រសៀលលើក អុជពន្លឺប្រទីបតាំងតុដល់អធ្រាត្រ ។

ម៉ោង ២០ គឺម៉ោង ៨ យប់ លោកឡឺគូវែរណើរ យេណេរ៉ាល និង លោកឡឺរេស៊ីដង់ សុប៉េរីយ៉ើរ រៀបរៀងថ្វាយភោជន៍ព្រះករុណាទ្រង់សោយឯប្រូតិកតូរ៉ាត៍ ។

ម៉ោង ២២ គឺម៉ោង ១០ យប់ ទទួលលៀងអស់អ្នករាជការបារាំងសែស រាជការខ្មែរ និង មហាជនទាំងអស់កំសាន្តសប្បាយក្នុងមន្ទីរប្រូតិក-តូរ៉ាត ។

## គម្រប់ ៦ ថ្ងៃ ពុធ ៨ កើត ខែទុតិយាសាឍ គឺថ្ងៃទី ២៥ ខែស៊ូយេត

ម៉ោង ៦ ព្រឹក សាធុដែលតាំងគ្រឿងសក្ការបូជា ។

ម៉ោង ១៧ គឺម៉ោង ៥ រសៀល ព្រះករុណាទ្រង់គ្រឿងធម្មតា ស្ដេចចេញលត់ទៀនជ័យ និងប្រគេនទេយ្យធម្មព្រះសង្ឃក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ។

## ក្បួនវិធីឡើងព្រះទីនាំងមហាមន្ទីរក្នុងព្រះបរមរាជវាំង

ដល់ពេលហោត្រូវបាល័ដ្ឋទូលជូនក្រុមវាំង ក្រាបបង្គំទូលព្រះករុណាជាអម្ចាស់ជីវិតលើត្បូង សូមទ្រង់ជ្រាបក្រោមល្អងធូលីព្រះបាទ ។

ឧកញ៉ាវាំងវរវៀងជ័យ ត្រូវរៀបក្បួនហែព្រះករុណាស្ដេចព្រះរាជដំណើរឡើងព្រះទីនាំងមហាមន្ទីរតាមលើមាគ៌ាក្រាលកន្ទេលនិងសំពត់សលើ ។ ឧកញ៉ាវង្សាសារពេជ្រចាងហ្វាង ឧកញ៉ាសុត្តន្តប្រីជាចាងហ្វាងក្រុមព្រះរាជបណ្ឌិត ត្រូវនិមន្តព្រះពុទ្ធរូប តម្កល់លើគោក បាំងព្រះភូសពណ៌សហែមុខព្រះករុណា ។

សម្តេចព្រះឥសីភទ្ធធិបតី ព្រះព្រហ្មាធិរាជ ឧកញ៉ាហោរាធិបតីចាង ហ្វានហែក្រោយព្រះពុទ្ធរូប ឧកញ៉ាកោសាធិបតីទិន ឧកញ៉ាព្រះឃ្លាំងធិបតីនាយឃ្លាំងមណីរត្ន អញ្ជើញក្អកដំរី ១ គូ តម្កល់លើតោក ឧកញ៉ាបវរនាយកអញ្ជើញកុយ ១ គូ តម្កល់លើពានមាស របស់ទាំងនេះ ជាគ្រឿងត្រដាក់ត្រដុំ ចម្រើនព្រះសិរីសួស្តីសុវត្ថិពិភទ្ធមង្គលជ័យ ។

## ហែក្រោយព្រះករុណា

១- ស្ត្រីកែវ ១ នាក់ស្លៀកសំពត់សារបាប់ស ឬ ល្បីកសសំឡុយេ ពានាគតសប៉ានឃ្មុប អញ្ជើញព្រះទម្រង់អស្សឡៀយ ។

## ស្ត្រីមង្គលទាំង ៤ ទ្វីបគឺ

២- ស្ត្រីបុព្វវិទីទ្វីប ១ ស្លៀកសំពត់សារបាប់ ឬ ល្បីកពណ៌ពានាពណ៌លឿងកាច់ផ្កាមាស ។

៣- ស្ត្រីជំពូទ្វីប ១ ស្លៀកសំពត់សារបាប់ ឬ ល្បីកពណ៌ ពានាពណ៌ពេជ្រ កាន់ផ្កាមាស ។

៤- ស្ត្រីអបរគោយានទ្វីប ១ ស្លៀកសំពត់សារបាប់ ឬ ល្បីកពណ៌ ពានាពណ៌លឿងខ្ចីកាន់ផ្កាប្រាក់ ។

៥- ស្ត្រីឧត្តរកុរុទ្វីប ១ ស្លៀកសំពត់សារបាប់ពណ៌ ឬ ល្បីក ពានាពណ៌មរកត កាន់ផ្កាប្រាក់ ។

ស្ត្រីទាំង ៩ នេះ ត្រូវរើសក្នុងពពួកត្រកូលប្រកបដោយលក្ខណបរិសុទ្ធ រុងរឿងល្អ ។

៦- ស្ត្រី ១ នាក់ស្លៀកសារបុាប់ ឬ ល្បើកសំឡុយ ពានាតាតប៉ាន ឃ្លឹបអញ្ជើញព្រះពានមាស តម្កល់ថវិកាសារបុាប់ដាក់ត្បូងផ្សេង ៗ ។

៧- ស្ត្រី ១ នាក់ ស្លៀកសារបុាប់ឬល្បើក សំឡុយពានា តាតប៉ាន ឃ្លឹប អញ្ជើញព្រះពានតម្កល់ថវិកាសារបុាប់ដាក់សុវណ្ណ ( មាស ) ។

៨- ស្ត្រី ១ នាក់ ស្លៀកសារបុាប់សំឡុយ ពានាតាតប៉ានឃ្លឹប អញ្ជើញព្រះពានតម្កល់ថវិកា សារបុាប់ដាករជត ( ប្រាក់ ) ។

៩- ស្ត្រី ១ នាក់ ស្លៀកសារបុាប់សំឡុយ ពានាតាតប៉ានឃ្លឹប អញ្ជើញព្រះពានតម្កល់ មណីសិលា បិទមាសជារបស់មង្គល ។

១០- ស្ត្រី ១ នាក់ ស្លៀកសារបុាប់ ឬ ល្បើកសំឡុយ ពានាតាត ប៉ានឃ្លឹប អញ្ជើញព្រះពានតម្កល់ ត្រឡាចបិទមាស ។

១១- ស្ត្រី ១ នាក់ ស្លៀកសារបុាប់ ឬ ល្បើកសំឡុយ ពានាតាតប៉ាន ឃ្លឹប អញ្ជើញព្រះពានតម្កល់ ថវិកាដាក់លាក់បិទមាសទុកជាលក្ខិណា ព្រះទីនាំង ។

១២- ស្ត្រី ១ នាក់ ស្លៀកសំពត់សារបុាប់ ឬ ល្បើកពានាតាមពណ៌ ថ្ងៃ នាងវិឡាវត្នាញ្ញី ពាក់ដីដាំត្បូងពេជ្រ ត្បូងទទឹម ត្បូងមរកត តំណាងកសិ កេក្ខព្រះទីនាំង ។

១៣- ស្ត្រី ១២ នាក់ ស្លៀកសំពត់សារបុាប់ ឬ ល្បើកពានាតាតពណ៌

អញ្ជើញគ្រឿងសម្រាប់ឥស្សរិយយសព្រះមហាក្សត្រ ។

ព្រះរាជវង្សានុវង្ស ស្ត្រីទឹងព្រះស្នំក្រុមការខ្ញុំរាជការ ស្ត្រីជំទាវខុនណាង គ្រប់ក្រុមហែតាម ។

ឯឧកញ៉ាមហាមន្ត្រី ឧកញ៉ាមហាទេព ស្លៀកសំពត់ ពាក់អាវសារបាប់ទឹងអាវផាយ ពាក់លំផក ។

ព្រះឥន្ទកោរក្ខការ ព្រះព្រហ្មធិរាជ ស្លៀកស ពាក់អាវផាយតាំង ៤ នាក់ តំណាងទេវតា ឈរប្រចាំសោបាណព្រះទីនាំងមហាមន្ទីរមានគ្រឿងបំអាប ១ គុ បង្អែម ១ គុ និង ក្បាលជ្រូក ១ គូ សែនយក្ខទេវតា ដែលរក្សាព្រះសោបាណ ។ លុះក្បួនហែមកដល់ព្រះសោបាណនោះ សម្ដេចព្រះឥសីភទ្ទធិបតី និង ឧកញ៉ាហោរាធិបតីចាងហ្វាងសូត្រប្រកាសទេវតាថា ៖

ភោន្តោ ទេវសំឃា យោ

( ប្រែថា ) បពិត្រអស់ពួកទេវតាដ៏ចម្រើន បានមកសន្និបាតប្រជុំព្រមនៅស្ថានទីនេះហើយឬទៅណា (ទើបតំណាងទេវតាទាំង៤ ឆ្លើយថា៖ យើងសណ្ឋិតនៅក្រោមមហាស្វេតច្ឆត្រ នៅស្ថានវិមានព្រះមហារាជមន្ទីរ ក្នុងព្រះបរមរាជវាំងនេះជានិច្ច មិនបានទៅណាទេ អ្នកមានការអ្វីសូមថ្លែងសេចក្ដីមក ) ។

ទើបស្ដេចឥសីភទ្ទធិបតី និង ឧកញ៉ាហោរាធិបតី ចាងហ្វាងឆ្លើយថា យើងខ្ញុំហែព្រះករុណាជាអម្ចាស់ជីវិតលើត្បូង ព្រះនាមព្រះបាទសម្ដេចព្រះ

ស៊ីសុវត្ថិមុនីវង្ស ចមចក្រពង្សហរិរាជបរមិន្ទរ ភូវណៃក្រៃកែវហ្វាសុឡាខ្សៃ ព្រះចៅក្រុងកម្ពុជាធិបតី ស្ដេចព្រះរាជដំណើរ មានគ្រឿងឥស្សរិយយស គ្រប់តាមទំនៀម មកឡើងព្រះទីនាំងមហាមន្ទីរ ជាទីគង់លើព្រះទែនក្រោម ✓ព្រះមហាស្វេត្រច្ឆត្រ ទ្រង់គ្រងរាជសម្បត្តិ ជាអម្ចាស់ជីវិតលើត្បូង សូមទេវតាចម្រើនព្រះជន្ម ឲ្យបាន ១០០ ព្រះវស្សា ជាសុខក្សេមក្សាន្តស្ថិតស្ថេរចិរកាលតទៅ បើទេវតាយល់ថា វេលានេះជាមហាវិជ័យមង្គលឫក្សមានជោគល្អ ចូរសម្ដែងមក ។ ( ទេវតាឆ្លើយថា ) យើងស្ថិតនៅរក្សាព្រះមហារាជមន្ទីរនេះ និងព្រះមហាស្វេត្រឆ័ត្រ ក្នុងព្រះបរមរាជវាំងនេះ បម្រុងថ្វាយព្រះបាទសម្ដេច ព្រះស៊ីសុវត្ថិមុនីវង្ស ចមចក្រពង្ស ព្រះចៅក្រុងកម្ពុជាធិបតី ស្រេចហើយវេលានេះ ជាជ័យមង្គលឫក្សជោគល្អ ហើយយើងជាទេវតា សូមថ្វាយព្រះមហាស្វេត្រច្ឆត្រឧត្តមមហាមន្ទីរស្ថាន សូមអញ្ជើញព្រះករុណាជាអម្ចាស់ជីវិតលើត្បូង ស្ដេចយាងឡើងគង់លើព្រះម-ហាមន្ទីរស្ថាន សូមចម្រើនសេចក្ដីសុខសួស្ដីវិជ័យមង្គល មហាប្រសើរថ្វាយព្រះជន្មទីឃាយុយឺនយូរ បាន ១០០ ព្រះវស្សា ទ្រង់រាជសម្បត្តិរក្សាព្រះពុទ្ធសាសនា ព្យាប់ទំនៀមព្រះនគរ ព្រះរាជវង្សានុវង្ស ព្រះសង្ឃក្រុមការ អគ្គមហាសេនាសេនាបតី នាម៉ឺនសព្វមុខមន្ត្រី ករវេបណ្ឌិត ព្រាហ្មណ៍ព្រឹទ្ធា-មាត្យ ជំទាវខុនណាង និងខ្ញុំរាជការ អាណាប្រជានុរាស្ត្រ ឲ្យប្រកបដោយនូវសិរីសុខាមហាប្រសើរ ស្ថិតស្ថេរចិរកាលតទៅហោង ។

ស្តេចព្រះឥសីកម្មធិបតី និង ឧកញ៉ាហោរាធិបតី ទទួលសាធុការពរ ក្រាបបង្គំទូលអញ្ជើញស្តេចយាងឡើងតាមព្រះសោបាណ ទូងគងជ័យ ព្រាហ្មណ៍ផ្លុំស័ង្ខត្រែតន្ត្រី ។ ទើបឧកញ៉ា វាំងវរវៀងជ័យ ចេញមកទទួល ក្រាបថ្វាយបង្គំ អញ្ជើញព្រះករុណាស្តេចយាងចូលទៅក្នុងព្រះមហាមន្ទីរ ក្រឡាព្រះបន្ទំ ទ្រង់យាងទតគ្រប់ទី តាមសព្វព្រះរាជហឫទ័យ រួចជួបជុំព្រះរាជវង្សានុវង្ស ព្រះស្នំក្រមការ ព្រះគ្រូ អគ្គមហាសេនាសេនាបតី នាម៉ឺន សព្វមុខមន្ត្រីក្រាបថ្វាយបង្គំគាល់ ។

រួចព្រះករុណា ស្តេចយាងទៅថ្វាយបង្គំ ព្រះបរមអដ្ឋិក្នុងហោព្រះអដ្ឋិ ហើយស្តេចយាងចេញ ទ្រង់ព្រះសណ្តាប់ សូត្រមន្តក្នុងព្រះទីនាំងទេវាវិនិច្ឆ័យ ក្នុងព្រះរាជពិធីឡើង ព្រះមហារាជមន្ទីរ និងរាជាភិសេក ។

## ក្បួនរំលឹកព្រះមហាក្រស័ត្រដែលទ្រង់ព្រះរាជាភិសេក

សោមហាសត្តោ សិនេរុអធិដ្ឋានកាយំ បញ្ញាភិសេកំ អធិដ្ឋាសិ ។

ឯព្រះមហាក្សត្រ លុះបានរាជាភិសេក ជាឯករាជហើយគប្បីអធិដ្ឋាន ព្រះអង្គថា ព្រះអង្គយើងនេះគឺភ្នំព្រះសុមេរុរាជ ដ៏តាំងនៅចារឹកព្រះធរណី ក្នុងប្រថពីតល ឯព្រះនេត្ររបស់យើងខាងស្តាំគឺព្រះអាទិត្យ ព្រះនេត្រយើង ខាងឆ្វេងគឺព្រះចន្ទ្រ ដ៏ផ្ទុះបំភ្លឺលោកឲ្យភ្លឺរុងរឿង ច្បាស់ស្រឡះនៅក្នុងព្រះហឫទ័យ និង កាត់នូវទុក្ខភ័យនៃមនុស្សឲ្យប្រាកដ ក្នុងព្រះឧបេក្ខាបរិញ្ញតិ

ដែលក្តៅក៏ឲ្យក្តៅ ដែលត្រជាក់ក៏ឲ្យត្រជាក់ តាមព្រះបវេណី ដូចគ្នា ព្រះហស្ត ឆ្វេង ស្តាំ នូវព្រះបាទ ទាំងពីរនោះ គឺទ្វីបទាំង ៤ ស្វេតច្ឆត្រទាំង ៦ ជាន់នោះគឺ ឆកាមាវចរទាំង ៦ អធិដ្ឋានព្រះទុក្ករ ខ្ជាប់មិនបានញាប់ញ័រ ក្នុងព្រះរាជហឫទ័យ ព្រះមហាម្កុដនោះសោត គឺកំពូលវិមានព្រះឥន្ទ្រ ព្រះខ័ននោះគឺប្រាជ្ញាការពារនឹងកាត់មន្ទិលនៃមនុស្សឲ្យឃើញច្បាស់ សព្វលោកធាតុ ។

ឯគ្រឿងប្រដាប់គឺព្រះភូសាវត្ថកម្ពលនោះ គឺភ្នំគន្ធមាទន៍រណ្ដាប់ភ្នំព្រះសុមេរុរាជ ។ ឯព្រះអង្គមហាក្សត្រនោះគឺព្រះវិន័យធម៌ដ៏តម្រង់រាស្ត្រប្រដៅឲ្យប្រាកដក្នុង[illegible]ជម្ពូទ្វីប សុពណ៌បាទនោះគឺផែនដីជាទីរងភ្នំព្រះសុមេរុរាជ និងជាទីអាស្រ័យនៃអាណាប្រជានុរាស្ត្រទាំងឡាយ សព្វដែនខបខ័ណ្ឌសីមា ហើយ[illegible] ដោយព្រះយសព្រះតេជរបស់ព្រះមហាក្សត្រនោះផង ។

ឆសុបញ្ញត្តិយា មហាសត្តអប្បកាយោ បញ្ញត្តិយោ អប្បមាតិ ។

មានក្នុងគម្ពីរព្រះបាលី ព្រះលោកបញ្ញត្តិសម្រាប់ព្រះបរមក្សត្រ និងរក្សាព្រះអង្គឲ្យចម្រើន គឺកុំឲ្យឈ្ងៀងព្រះនេត្រទត មើលព្រះអាទិត្យ ១ កុំឲ្យ[illegible]ព្រះកាយវិតក្កៈឡើង ១ កុំឲ្យសោយព្រះសិទ្ធិសេល្អក់ ព្រះសិទ្ធសេព្រាំ, [illegible]ព្រះស្រួល ១, កុំឲ្យសោយត្រីសាច់ដ៏ឆ្អាប និង

ខ្លាញ់ ១, កុំឲ្យសោយព្រះឱសថដែលពេទ្យផ្សំមិនគួរ នឹងសោយ ១, កុំឲ្យសោយរបស់ដែលទំពារ ដែលខាំ ១, កុំឲ្យសេពកាមគុណ នឹង ស្ត្រីមានអាយុ ៤០ ឆ្នាំ និង ៥០ ឆ្នាំ ១, កុំឲ្យទ្រង់ព្រះកូសាមានសាច់គ្រោកគគ្រោតគមិនល្អ ១, ហេតុទាំងដប់ប្រការនេះ មិនគួរដល់ព្រះបរមក្សត្រឡើយ ។

## គ្រឿងទេយ្យទាន

ដែលត្រូវប្រគេនព្រះសង្ឃក្នុងឱកាសបុណ្យរាជាភិសេក ។

ព្រះសង្ឃចម្រើនព្រះពុទ្ធមន្ត ឡើងព្រះទីនាំងមហាមន្ទីរនិងបុណ្យរាជាភិសេក រួមទាំងអស់ ៦៧ អង្គ ។

ត្រូវក្រមពាំងអាលក្ខណ៍ និង យ៉ាំងទិញគ្រឿងទេយ្យទានដូចមានចំនួនខាងក្រោមនេះក្នុងមួយមុខ ៗ ។

ត្រៃព្រៃម្ខាង, ទេសម្ខាង, ស្បង់ព្រៃ, ស្បែកជើងផ្គៀប, កន្សែងស, គោមឡូតទៀនបាំង, ហោទៀនបាំងធំវែង កាំបិតកោ, ថូសំលៀកកាំបិតកាស្រោកតែណាយ័ស៊ីម, កំសៀវស្ពាន់, ស្គរបាំង, ធូបក្រអូបយ៉ាងល្អឈើគូសភ្លើង, ឆ័ត្រដងឫស្សី ។

រៀបគោជនាហារចង្ហាន់តង្វាយព្រះ ៣ សម្រាប់ ចង្ហាន់ព្រះសង្ឃ ៤៨ សម្រាប់ ៗ មុខងារដាំបាយចង្ហាន់ ៤៨ អង្គ ត្រូវ ៧២ នាឡិ ទិញ ឱសថផុត ។

ឧកញ៉ាបម្រុងសក្ការ និង ព្រះប៉ាន់ធិបតី មុខងារខាងដាំតែរៀបដាំតែប្រគេនព្រះសង្ឃ ។ តែណាយីស៊ុម ៤ សំណុំ ស្ករសបាក់ង ១០ នាឡិ ធ្យូងកោងកាង ៤០ នាឡិ ។

ក្រុមរាជការ ស្ត្រីខាងក្នុងព្រះបរមរាជវាំង ត្រូវរៀបប្រគល់ឲ្យមុខងារប្រគេន និងប្រើការក្នុងបុណ្យ គឺក្រមួនឃ្មុំ ៦០ នាឡិ អម្បោះប្រឆេះ ៤ នាឡិ, ធូបលឿង ៣០ សំណុំ, ទៀនបាក់ងស្រោត ៩ ហាប, ទៀនបាក់ងស្រោប ៣ ហាប ថ្នាំ ៣០ នាឡិ, ស្លាស្ងួត ៣០ នាឡិ, ម្លូសម្រាំង ៥ ពាន់, ស្លាផ្កា ៨ នាឡិ, ស្លឹកបេកស្រស់ ២៥០ សំណុំ, ស្លឹកបេកក្រៀម ១២០ សំណុំ, កំបោរក្រហម ២ ដុំ, ធ្យូងកោងកាង១ ហាប, ប្រេងដូង ១ នាឡិ ។



# ក្បួនហែ

## ព្រះករុណាជាអម្ចាស់ជីវិតលើត្បូង
## ប្រទក្សិណព្រះនគរ គឺជុំវិញក្រុងភ្នំពេញជាក្រុងមឿង
## ក្រុងកម្ពុជាធិបតី
## ក្នុងឱកាសព្រះរាជពិធីរាជាភិសេក

### រៀបជា ៨ ជួរ

| | |
|---|---|
| ទង់ជ័យរូបអាជានេយ្យធំមាស ១ | ភ្លេងពិណពាត ១ វង់ |
| ភ្លេងបារាំង ១ វង់ | នាយត្រួត ១ នាក់ |
| ទង់ប្រាសាទធំ ១ | ក្រុមពិជ័យសង្គ្រាមខ្មែរ ១ វង់ |
| ទង់ប្រាសាទធំ ១ | ទាហានកាំភ្លើងធំ |
| ភ្លេងបារាំង ១ វង់ | នាយត្រួត |
| យុទ្ធនាបារាំងសែស ១ ក្រុម | ភ្លេងពិណពាត ១ វង់ធំ |
| នាយត្រួត ១ នាក់ | នាយត្រួត |
| ខ្លងយ៉ាវ ១ វង់ | ទាហានកាំភ្លើងធំ |
| នាយត្រួត ១ នាក់ | ក្រុមរក្សាស្រុក ១ វង់ |
| យុទ្ធនាធិការបារាំងសែស ១ ក្រុម | នាយត្រួត |
| ក្រុមពិជ័យសង្គ្រាមខ្មែរ ១ ក្រុម | ខ្លងវែង ១ វង់ |
| នាយត្រួត ១ នាក់ | នាយត្រួត |

ក្រុមក្បាស្រុក ១ វង់
ទង់នាគ ៣០
សារ៉ាត់ត្រួត
ខ្វង់ខែក ១ វង់
សារ៉ាត់ត្រួត
ទង់នាគ ៣០
ក្រុមក្បាព្រះអគ្គ ១ ក្រុម
នាយត្រួត
ក្មេងជ្វា ១ វង់
នាយត្រួត
ក្រុមក្បាព្រះអគ្គ ១ ក្រុម
នាយត្រួត
ក្មេងចិន ១ វង់
នាយត្រួត
ទង់ក្អួប ៣០
សារ៉ាត់ត្រួត
សារ៉ាត់ត្រួត
ទង់ក្អួប ៣០
កាពក់ឡើរ ជិះសេះ ២៥
មន្ត្រីបាម ជ្វា ១០

កាពក់ឡើរ ជិះសេះ ២៥
ដាវខែល ៥០
មន្ត្រីយួន
ក្មេងម៉ាឡាយូ ១ វង់
មន្ត្រីយួន
ដាវខែល ៥០
ឧកញ៉ាទេវវជ្ជូនជិះសេះ
កន្ទុយក្ងោក
មន្ត្រីចិន
មន្ត្រីចិន
ឧកញ៉ាកដវពន្ធុកូលជិះសេះ
កន្ទុយក្ងោក
យោក្បត្រ
យោក្បត្រ
តម្រួតរំពាត់ប៉ាប់ ៣០
សុភា
ស្គរជ័យ
តម្រួតរំពាត់ប៉ាប់ ៣០
ប៉ាឡាត់
ប៉ាឡាត់

ទន់ម្ករ
ចៅហ្វាយស្រុក ចៅហ្វាយខែត្រ
គនជ័យ
ចៅហ្វាយស្រុក ចៅហ្វាយខែត្រ
ទន់ម្ករ
មន្ត្រីសក្ត ៦ ហូពាន់ដល់ ៨ ហូពាន់
ដើរហែ
មន្ត្រីសក្តិ ៦ ហូពាន់ដល់ ៨ ហូពាន់
ដើរហែ
តម្រួតមុខកាន់លំពែង ២០
តម្រួតមុខកាន់លំពែង ២០
ចាមរ ៤
ខ្វិនឆ្នាក់ក្រហម ១០
ខ្វិនឆ្នាក់ប្រាក់ ១០
ខ្វិនឆ្នាក់មាស ១០
ចាមរ ៤
ព្រាហ្មណ៍គ្រវីពិនពាំង ១០
ព្រាហ្មណ៍គ្រវីពិនពាំង ១០
ព្រាហ្មណ៍ផ្លុំស័ង្ខ ៤

ក្រួនមហោធិក
ព្រាហ្មណ៍ផ្លុំស័ង្ខ ៤
ត្រែ-ន
ត្រែ-ន
ហោក ១
ហោក ១
ក្លូវតាន ៤
ស្គួចមាយ ១០
ស្គួចមាយ ១០
ក្លូវតាន ៤
ព្រះវង្ស ១០
ព្រះវង្ស ១០
មន្ត្រីកុនសក្តិ ៩ ហូពាន់ជិះសេះ
មន្ត្រីកុនសក្តិ ៩ ហូពាន់ជិះសេះ
អភិរម្យ ៤
ឧកញ៉ាមហាមន្ត្រីជិះសេះ
ឧកញ៉ាអគ្គមហាសេនាធិបតី ជិះ
ត្រែយោនមុខ
ឧកញ៉ាមហាទេពជិះសេះ

| | |
|---|---|
| ឧកញ៉ាពំងវរវៀងជ័យ ជិះគ្រែ | ព្រះអគ្គម្ចាស់ជិះសាលៀង |
| យៀង | ជិះសេះហែ |
| ចាំងសែង | នាម៉ឺនសក្តិ១០ហូពាន់ជិះគ្រែហែ |
| ព្រះរាជយានុមាត្យ ព្រះករុណាគង់ | មហាតលិកអញ្ជើញគ្រឿង |
| ចាំងសែង | នាម៉ឺនសក្តិ ១០ ហូពាន់ជិះគ្រែ ហែរ |
| អាលក្ខណ៍អញ្ជើញ ព្រះផ្កាមាស | ព្រះអគ្គម្ចាស់ជិះសាលៀង ជិះសេះ |
| ផ្កាប្រាក់ | ហែ |
| ថ្វាយបួយទាន | ទង់សត្វឥន្ទ្រី ៣០ |
| ឧកញ៉ាចក្រីធិបតីកុញ្ជរ ជិះគ្រែ | គជ្ជូនចំឡងសឹក ២ |
| យៀង | តម្រួតក្រោយកាន់លំពែង ១៩ |
| ឧកញ៉ាក្រឡាហោមជិះគ្រែយៀង | មហាតលិកប្រសែងជួន |
| ព្រះវិជ្ជូនីជ័យ | តម្រួតក្រោយកាន់លំពែង ១៨ |
| ចាំងសែង | គជ្ជូនចម្លងបឹក ២ |
| ព្រះវិជ្ជូនីជ័យ | គជ្ជូនយោង ៤ |
| ឧកញ៉ាយមរាជជិះគ្រែយៀង | ព្រះទីនាំងគជ្ជូនទ្រង់ករ |
| ភូសាមាលាអញ្ជើញគ្រឿង | គជ្ជូនយោង [illegible] |
| ភូសាខាលាអញ្ជើញគ្រឿង | កាន់ដំបងរមួល ៨០ នាក់ |
| ទង់សត្វឥន្ទ្រី ៣០ | សារ៉ីត្រួត ៦ |

គជេ្ជន្ទព្រះទីនាំងព្រះ

សារ៉ាតត្រួត ៗ

កាន់តំបងរមួល ៨០ នាក់

ដំរីសារ ១

គជេ្ជន្ទព្រះទីនាំងគជាញជ័យ

មន្ត្រីក្រុមរាំង

មន្ត្រីក្រុមរាំង

ព្រះទីនាំងគជេ្ជន្ទគង់

ព្រះទីនាំងគជេ្ជន្ទគង់

មន្ត្រីក្រុមរាំង

ព្រះទីនាំងអស្សតរគង់

មន្ត្រីក្រុមរាំង

ព្រះទីនាំងអស្សតររង

ព្រះនរិន្ទរសេនីយជិះសេះកន្ទុយ

ក្បោក

ព្រះមហារាជរថទឹមសេះ ៦

ព្រះស្រីសាទេពជិះសេះកន្ទុយ

ក្បោក

## ដូចមានផែនទី

## បូករួមក្នុងក្បួនហៃ

១ អគ្គមហាសេនា ១

២- សេនាបតី ៤

ព្រះរាជវង្សានុវង្សក្សត្រា

៣- គឺ ព្រះអង្គម្ចាស់ ៥ } ៣៤
អ្នកអង្គម្ចាស់ ២៩ }

៤- មន្ត្រីសក្តិ ១០ ហូពាន់ ក្នុង

ក្រុង ១

៥- ចាងហ្វាងក្រុមបារគូបុរោហិត ១

៦- ក្រុមបារគូបុរោហិត ២៦

៧ ចាងហ្វាងក្រុមព្រះវង្ស ១

៨- មន្ត្រីក្នុងក្រុង ៥០០

## តុលាការក្នុងក្រុង

៩. ចានហ្វាន ៥
១០. ចៅក្រម ១៨
១១- ក្រឡាបញ្ជី ២០
១២- សមុហបញ្ជី ២៧
} ៧០

១៣- ត្រួតខេត្ត ១
១៤- ចៅហ្វាយ ១៥
} ១៦

១៥- ចៅហ្វាយស្រុក ១២
១៦- ចៅហ្វាយខ័ណ្ឌ ៨៥
} ៩៧

## តុលាការខេត្ត

១៧- ចានហ្វាន ១៤
១៨- ចៅក្រម ២០
១៩- ក្រឡាបញ្ជី ១៣
២០- សមុហបញ្ជី ៤៣
} ៩០

២១- សេនាពាហន ៦ ក្រុម
២២- នាយត្រួត ៣
២៣- កាក់ឡឺជិះសេះ ៥០
២៤- តម្រួតមុខកាន់លំពែង ៤០
២៥- តម្រួតមុខកាន់រំពាត់ហាច់ ៦០

២៦- មន្ត្រីតាមផ្លា ១០
២៧- ព្រាហ្មណ៍គ្រវីតឹងពាំង ២០
២៨- -ដ- ផ្លុំស័ង្ខ ៨
២៩- ហោរា ២
៣០- ស្តេចមាឃ ២០
៣១- ព្រះវង្ស ២០
៣២- តម្រួតក្រោយកាន់លំពែង ៣០
៣៣- តម្រួតក្រោយដំបងរបួល ១០០
៣៤- ដាវ ៥០ ខែល ៥០ ជា ១០០
៣៥- ចាំមរ ១០
៣៦- ភ្លូវគាន ១០
៣៧- អគ្គិមេ្យ ៤
៣៨- ទង់ ១៨៣
៣៩- ភ្លេង ៦ វង្ស
៤០- ខ្លង ឆ្នាក់ ៣០
៤១- គជេន្ទ្រចំឡងសឹក ៤
៤២- គជេន្ទ្រយាន ៨
៤៣- ព្រះទីនាំងគជេន្ទ្រទ្រង់ករ ១

៤៤- គជេន្ទ្រ ព្រះទីនាំងព្រះ ១

៤៥- ដំរីស ១

៤៦- គជេន្ទ្រព្រះទីនាំងគជាញជ័យ១

៤៧- ព្រះទីនាំងគជេន្ទ្រគង់ ១

៤៨- -ដ- រទេះ ១

៤៩ ព្រះមហាកដរថ ១ ទឹមសេះ៦

៥០- ព្រះទីនាំងអស្សគេគង់ ១ ។

៥១- -ដ- រទេះ ១ ។

៥២- មន្ត្រីជិះសេះកន្ទុយក្អែក ៤

៥៣- មន្ត្រីជិះសេះ ៤

បូកផ្ដាច់មនុស្ស ១៤៧៧ នាក់

— ដំរី ១៨

— សេះ ៦៦

# ទ្រង់ព្រះរាជានុញ្ញាត

ព្រះករុណាព្រះបាទសម្ដេចព្រះ ស៊ីសុវត្ថិមុនីវង្ស ចមចក្រពង្សព្រះ
ចៅក្រុងកម្ពុជាធិបតី ។

ជាអម្ចាស់ជីវិតលើត្បូង

ឡាយព្រះហស្តលេខា : ព្រះស៊ីសុវត្ថិ-មុនីវង្ស

យល់ព្រម

កុង្សីសេនាបតី

ក្រុមព្រះនរោត្តម ភាណុវង្ស ទីអគ្គមហាសេនាធិបតី

ភាណុវង្ស

ឧកញ៉ា ចក្រីធិបតីកុញ្ជរ

**ប៉ុន**

ឧកញ៉ាយោមរាជ

**ជា**

ឧកញ៉ាកំនវរវៀនជ័យ

**ជួន**

ក្រុមហ្លួងស៊ីសុវត្ថិ សុផានុវង្ស

ទីក្រឡាហោម

**សុផានុវង្ស**



# អំពីតាំងតុរបស់ព្រះរាជបណ្ណាល័យកម្ពុជា

ក្នុងឱកាសបុណ្យរាជាភិសេក

## អ្នកស្រី ស៊ុយ សាន ការប៉ុឡែស អធិប្បាយ

---

ក្នុងឱកាសពិធីបុណ្យ រាជាភិសេក ព្រះករុណាព្រះបាទសម្តេច ព្រះស៊ីសុវត្ថិ-មុនីវង្ស ព្រះរាជបណ្ណាល័យកម្ពុជា បានចាត់ការរៀបចំ តាំងតុថ្វាយជាទីសមនឹងព្រះកិត្តិយស ដ៏ខ្ពង់ខ្ពស់ថ្លៃថ្លាណាស់ គឺបានរចនា ជាមុខ ដ៏ពាសទីទៅទូវសំពត់ពណ៌លឿងទុំ មានកម្ពស់ជាង ៣ ម៉ែត្រ កំពូលនៃមុខនោះ បានរចនាជារស្មី ចាំងធ្លុះជារង្វង់មូល ឯតែមុខទាំង សងខាងបានប្រដាប់ដោយកែវ ប្រឆេះអគ្គិសនីជាច្រើនមានពណ៌ក្រហម និងបៃតងរៀបរៀង ធ្លុះពណ៌គ្នាជាជួរជុំវិញ ខាងក្នុងនៃមុខនោះ បាន រៀបសុទ្ធតែសៀវភៅ មានពណ៌មាសបញ្ឈររៀងគ្នាទាំងសងខាងមុខនោះ មានរៀបតុបូល ១ ម្ខាង ហើយបានតម្រៀបតម្រួតសៀវភៅផ្សេងៗ ដែល ទើបនឹងបោះពុម្ពហើយ ក្នុងជាន់ក្រោយ ធ្វើជាក្នំ គឺសៀវភៅដែល អធិប្បាយអំពីប្រាសាទខ្លះនៅអង្គរ ១ ទសបារមិកថា ១ និង គតិលោក ខ្សែពីរ ១ ។

ក្នុងពេលរាត្រី ដោយអំណាចពន្លឺក្រហមនិងពន្លឺបៃតង ធ្លុះឆ្លាស់គ្នា មុខនោះហាក់ដូចជាអណ្តែតត្រសែត នភាល័យប្រទេស មានសណ្ឋាន

ដូចជាមាសក្រហមទ្នោលប្រាលផ្អៅ ជាទីគួរគយគន់ ហើយសក្តិសម ដល់ព្រះរាជពិធីរាជាភិសេក នៃព្រះករុណាព្រះបាទសម្តេច ព្រះ ស៊ីសុ-វត្ថិ មុនីវង្ស ព្រះចៅក្រុងកម្ពុជាធិបតី ។



# ព្រះបាទសម្តេចព្រះស៊ីសុវ៉ាងវង្ស

### ព្រះចៅក្រុងលាវ

## ស្តេចចូលក្រសាលក្នុងព្រះរាជបណ្ណាល័យកម្ពុជា

---

នៅវេលាដែលសូរ្យបុណ្យពុកជាតិសេកជាជ្រះស្រឡះហើយ ព្រះបាទសម្តេចព្រះ ស៊ីសុវ៉ាងវង្ស ព្រះចៅក្រុងហ្លួងព្រះបាងទ្រង់យល់ថា នឹងមិនទ្រង់ព្រះរាជដំណើរចេញពី ក្រុងភ្នំពេញ ដោយឥតបានស្តេចចូលក្រសាលក្នុងព្រះរាជបណ្ណាល័យ មួយអន្លើនឹងព្រះអង្គម្ចាស់ពេជរត្ន និងបណ្ឌាអ្នករាជការ ដែលហែហមមកទាំងប៉ុន្មានឡើយ ។

កាលពីថ្ងៃ ២៥ សូយេត ឆ្នាំ ១៩២៨ អ្នកស្រីស៊ុយសានការប៉ឺឡែស ជាបណ្ណារក្សនៃព្រះរាជបណ្ណាល័យ ជួបជុំនឹងអ្នករាជការក្នុងមន្ទីរនេះគ្រប់គ្នា បានអធិប្បាយសេចក្តីយ៉ាងវែង ថ្វាយស្តេចស្រុកលាវ អំពីសេចក្តីបម្រើនិងពន្ធរបស់មន្ទីរថ្មីនេះ បានថ្វាយ សៀវភៅគ្រប់យ៉ាងដែល ព្រះរាជបណ្ណាល័យបានផ្សាយ ហើយសៀវភៅទាំងនោះ សុទ្ធតែធ្វើ ក្របពណ៌មាសទាំងអស់ ព្រះចៅក្រុងលាវទ្រង់គាប់ព្រះរាជហឫទ័យពេញទី អំពីដែលបានឃើញអ្វី ៗ ទាំងអស់ ហើយទ្រង់ថ្លែងសេចក្តីសរសើរជាច្រើនប្រការដល់បណ្ណារក្សនៃព្រះរាជបណ្ណាល័យ សេចក្តីសរសើរជាការនាំឲ្យព្រះរាជបណ្ណាល័យរឹងរឹតតែមានកម្លាំងក្លាហាននឹងធ្វើការតទៅទៀត ។

ព្រះអង្គម្ចាស់ ពេជរត្ន បានយាងចូលព្រះរាជបណ្ណាល័យក្នុងគ្រាក្រោយម្តងទៀត ហើយបានមានបន្ទូលអំពីដែលព្រះចៅលាវ មានសេចក្តីប្រាថ្នាក្នុងព្រះរាជហឫទ័យ ជានឹងតាំងបង្កើតមន្ទីរ ១ ឲ្យមានបែបសណ្ឋានដូចជាព្រះរាជបណ្ណាល័យកម្ពុជានេះ ព្រមទាំងសូមជំនួយពីព្រះរាជបណ្ណាល័យនិងសូមផលដែលកើតឡើងដោយសេចក្តីជំនាញប៉ិនប្រសប់ នៃមន្ទីរនេះផង ។



# សេចក្ដីអធិប្បាយព្រះរាជបណ្ណាល័យ

របស់លោកស៊ីលវ៉ាំងឡេវី

## ម៉ាដឺមូអាហ្សែលការប៉ឺឡែស

ប្រែពីភាសាអង់គ្លេសជាភាសាបារាំងសែស

## ក្រុមការ ជុំ-ម៉ៅ ប្រែមកជាភាសាខ្មែរ

---

គឺក្នុងទស្សនាវដ្ដី នៅស្រុកជប៉ុន បោះពុម្ពជាភាសាអង់គ្លេស ជាភាសាដែលអ្នកប្រាជ្ញក្នុងស្រុក អឺរ៉ុប រាប់គ្នាប្រើក្នុងការព្រះពុទ្ធសាសនាជាងគេ ដែលលោកស៊ីលវាំងឡេវី ជាគ្រូធំបំផុត ក្នុងការស្រាវជ្រាវរកពុទ្ធសាសនា បានចុះសេចក្ដីដូចមានខាងក្រោមនេះ អំពីព្រះរាជបណ្ណា-ល័យកម្ពុជា ។

## អំពីព្រះរាជបណ្ណាល័យកម្ពុជា

ប្រទេសឥណ្ឌូស៊ីនបារាំងសែស ជាផ្លូវបែកមុខ ៤ នៃសាលាធំ ២ របស់ព្រះពុទ្ធសាសនា ស្រុកខ្មែរនិងស្រុកលាវជាពួកខាងហីនយាន ដែលមានគម្ពីរដីកាជាភាសាបាលី ឯចំណែកស្រុកអណ្ណាមនិងស្រុកតុងកឹងជាពួកដែលក្លាយពីស្រុកចិនមក គឺពួកមហាយាន ។

ឯនគរបារាំងសែសជាទីកើតនៃវិជ្ជានានា ក្នុងពុទ្ធសាសនាដោយការថ្វីដៃរបស់អ្នកប្រាជ្ញធំៗ ដូចយ៉ាងលោក អាបែលរេមុយសាត៍ និង អឺ-សែនប៊ឺនូហ្វ៍ ដែលលោកបានខំស្រាវជ្រាវរកក្នុងពេលនេះ ក្រុងបារាំង

សេស ត្រូវធ្វើឲ្យឃើញកស្តុងតាំងផលប្រយោជន៍នៃការដែលបានស្រាវជ្រាវឃើញឡើង ។

អនាគតកាលនៃប្រទេសឥណ្ឌូស៊ីន អាស្រ័យយ៉ាងធំដោយតម្លៃសតិបញ្ញា និង ក្រិត្យក្រមអ្នកបួសក្នុងពុទ្ធសាសនា ដោយហេតុថាវត្ត-អារាមជាទីដើម នៃការសូត្ររៀន របស់អ្នកស្រុក ឯសាលាបាលីពិសេស នៅក្នុងប្រទេស ដែលបានតាំងបង្កើតពីកាលឆ្នាំ ១៩៤៩ ក្នុងអធិបតីជ័ប្រសើរថ្លៃថ្លានៃលោក ល្វីហ្វីណូត៍ នោះ ក៏បានទទួលកិច្ចនិងស្រាវជ្រាវរៈ រកពង្សាវតារប្រទេសកម្ពុជា និងចំការដែលកប់បាត់ទៅកាលជាន់ដើម មានតាំងបង្កើតសាលា បរិយត្តិ ១ នៅក្រុងភ្នំពេញ ។

នាងស្រីកញ្ញាការប៉ឺឡេស ដែលជាអ្នកបានប្រែហើយបានផ្សាយនូវសៀវភៅលោកេស្វរេត ជាភាសាសំស្ក្រឹតនិងភាសាស្រុកទីបេត៍បាន តាំងជាបណ្ណារក្សនៃព្រះរាជបណ្ណាល័យកម្ពុជា រាជមន្ទីរនេះបានផ្សាយនូវទស្សនាវដ្តីដែលចេញរាល់ខែ ហៅថាទស្សនាវដ្តី កម្ពុជសុរិយាដែលមាននិយាយសុទ្ធតែខាងការព្រះពុទ្ធសាសនាសេចក្តីសារប្រខ្ទីក្នុងចក្បាលៗ ដែលយើងបានទទួលទាំងប៉ុន្មាន ធ្វើឲ្យយើងឃើញផលប្រយោជន៍នៃសេចក្តីទាំងប៉ុន្មានដែលបោះផ្សាយនោះ . . . . .

ព្រះរាជបណ្ណាល័យបានបោះពុម្ពសៀវភៅផ្សាយជាច្រើនមុខណាស់ៗ

ស៊ុលភាំងឡេរី